គម្រោងបង្ហាញបច្ចេកវិទ្យា ដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប

Tonle Sap Technology Demonstrations for Productivity Enhancement

(TA 7305-CAM)

# សៀវភៅណែនាំបច្ចេកទេស ស្តីពី

# ការបង្កាត់ ភ្ញាស់កង្កែបក្នុងអាង






រៀបចំដោយ: គម្រោងបង្ហាញបច្ចេកវិទ្យា ដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD)

ឧបត្ថម្ភដោយ: ធនាគារអភិវឌ្ឍន៍អាស៊ី រដ្ឋាភិបាលប្រទេសហ្វាំងឡង់ និង រដ្ឋាភិបាលសាធារណៈរដ្ឋកូរ៉េ

ខែ សីហា ឆ្នាំ ២០១៣

# មាតិកាអត្ថបទ

# អារម្ភកថា

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយបច្ចេកទេស ដែលផ្តល់សហ-ហិរញ្ញប្បទានឥតសំណងសម្រាប់អនុវត្ត ដោយរដ្ឋាភិបាលហ្វាំងឡង់ មូលនិធិ ដៃគូអ៊ី-អាស៊ី និង ចែករំលែកពុទ្ធិនៃសាធារណៈរដ្ឋកូរ៉េ និង ធនាគារអភិវឌ្ឍន៍អាស៊ី (ADB) ។ រាជរដ្ឋាភិបាលកម្ពុជា ចូលរួមបដិភាគ មិនមែនជាថវិកា (ធនធានមនុស្ស ការិយាល័យបំពេញការងារ...) សម្រាប់អនុវត្តគម្រោង។ ធនាគារអភិវឌ្ឍន៍អាស៊ីជាអ្នកចាត់ចែងប្រតិបត្តិការផ្ទាល់ ជំនួសមុខឱ្យម្ចាស់ជំនួយ ។ គម្រោងកំពុងធ្វើការសាកល្បងបង្ហាញបច្ចេកវិទ្យា កសិកម្ម និង ផ្តល់សេវាព័ត៌មានជនបទ ដើម្បីបង្កើនប្រាក់ចំណូលរបស់គ្រួសារកសិករខ្នាតតូច ក្នុងខេត្ត កំពង់ចាម កំពង់ធំ សៀមរាប និង បន្ទាយមានជ័យ។

សៀវភៅណែនាំបច្ចេកទេសស្តីពី **ការបង្កាត់-ភ្ញាស់កង្កែបក្នុងអាង** នេះ បានរៀបចងក្រងឡើង ដើម្បីផ្តល់នូវចំណេះដឹង និង ចំណេះធ្វើជាក់ស្តែង ជាសង្ខេប ស្តីពី ការបង្កាត់-ភ្ញាស់កង្កែបក្នុងអាង ស៊ីម៉ងត៍ ឬ អាងកៅស៊ូ ដោយប្រើប្រាស់ ទីកន្លែងតូច ទឹកតិច ប៉ុន្តែត្រូវការទាមទារឱ្យប្រើថ្នាំផ្សំពីរុក្ខជាតិ ដែលមានតំលៃថោក និងអាចរកបានក្នុងមូលដ្ឋាននីមួយៗ ដើម្បីការពារជម្ងឺ និងធ្វើឱ្យកង្កែបមានសុខភាពល្អ ធំធាត់លឿន ។

ក្រៅពីលក្ខខ័ណ្ឌបច្ចេកទេស ភាពជោគជ័យក្នុងការបង្កាត់-ភ្ញាស់កង្កែប គឺ ផ្អែកលើប្រភេទ ឬគុណភាពចំណីដែលត្រូវផ្តល់ឱ្យកង្កែបក្នុងដំណាក់កាលក្រោយពីញាស់ រហូតដល់ពេលកូនកង្កែប ធំល្មមអាចយកទៅធ្វើពូជបាន គឺ ចំណីនោះត្រូវតែមាន ប្រូតេអ៊ីន ពី ៣៧ ទៅ ៤២% ទើបកូនក្អុក ឬ កូនកង្កែបធំធាត់លឿន ។

ខ្លឹមសារក្នុងសៀវភៅណែនាំបច្ចេកទេសនេះ ត្រូវបានរៀបចំឡើងសម្រាប់កសិករ ដែលចង់បង្កាត់-ភ្ញាស់កង្កែប និង ចិញ្ចឹមថែទាំកូនក្អុក-កូនកង្កែប ដោយផ្អែកលើជំហាននៃការអនុវត្តន៍បច្ចេកទេស និងបទពិសោធន៍ជាក់ស្តែង ដែលអនុវត្តបានទទួលបានជោគជ័យក្នុងកម្មវិធីបង្ហាញបច្ចេកទេស បង្កាត់-ភ្ញាស់កង្កែបក្នុងអាង តាមទីតាំងចំនួន ៦ កន្លែង ក្នុងខេត្តគោលដៅរបស់គម្រោង និង កសិដ្ឋានបង្កាត់ភ្ញាស់កង្កែបឯកជនដទៃទៀត ដែលគម្រោងបានផ្តល់ជំនួយបច្ចេកទេស។

ការអនុវត្តន៍កម្មវិធីបណ្តុះបណ្តាល និង ធ្វើបង្ហាញពីបច្ចេកទេស បង្កាត់-ភ្ញាស់កង្កែប ក្នុងអាង នេះ អាចទទួលបានជោគជ័យ ដោយមានការគាំទ្រពីបុគ្គលិកគម្រោង TSTD លោក ប្រាក់ **ថាវរមិដា** ប្រធានសម្របសម្រួលគម្រោង និង ជាអគ្គលេខាធិការរងនៃក្រសួងកសិកម្ម រុក្ខាប្រមាញ់ និង នេសាទ លោក **លីវ ណាងហ៊ី** ប្រធានក្រុមទីប្រឹក្សាគម្រោង និង ថ្នាក់ដឹកនាំ និងមន្ត្រីខណ្ឌរដ្ឋបាលជលផល ក្នុងខេត្តគោលដៅទាំងបួន។

**រៀបរៀងដោយ:**

លោក **សៀវ សៅភាគ្យ** អ្នកជំនាញផ្នែកវារីវប្បកម្ម របស់គម្រោង TSTD

ទូរស័ព្ទ: (855)-12 755 452 និង អ៊ីម៉ែល: saopheaksiev@gmail.com

## ១. សេចក្តីផ្តើម

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយបច្ចេកទេស ដែលផ្តោតសំខាន់ទៅលើការធ្វើពិសោធន៍ជាក់ស្តែង និងការធ្វើបង្ហាញនូវបច្ចេកវិទ្យាថ្មីៗ និង ការស្វែងរកវិធីសាស្ត្រផ្សព្វផ្សាយនូវរាល់បទពិសោធន៍ និង បច្ចេកវិទ្យាថ្មីៗ ទៅដល់កសិករ ក្នុងគោលបំណង៖

- ✧ បញ្ជ្រាបចំណេះដឹង និងចំណេះធ្វើស្តីពីបច្ចេកទេសបង្កាត់-ភ្ញាស់កង្កែបក្នុងអាង ដល់កសិករ។
- ✧ ជួយកាត់បន្ថយប្រាក់ចំណាយរបស់គ្រួសារក្នុងការទិញម្ហូប។
- ✧ បង្កើត និង បង្កើនមុខរបរ សម្រាប់កសិករនៅតាមជនបទ។
- ✧ រួមចំណែកក្នុងការចែកចាយពូជកង្កែប និងបង្កើនការផ្គត់ផ្គង់បរិមាណជាតិសាច់(ប្រូតេអ៊ីន)ដល់មនុស្សជាតិ។

កន្លងមកនៅប្រទេសកម្ពុជាយើង ការបង្កាត់-ភ្ញាស់កង្កែប នៅមិនទាន់ទទួលផលល្អនៅឡើយ ដោយសារកង្វះខាតផ្នែកបច្ចេកទេស និង ខ្វះចំណីដែលមានគុណភាព ធ្វើឱ្យអ្នកផលិតពូជកង្កែបមួយចំនួនធំ បានផ្អាក ឬ បញ្ឈប់សកម្មភាពផលិត ដោយពួកគាត់គិត ថាការបង្កាត់ភ្ញាស់កង្កែប មានការលំបាកជាពិសេស ក្នុងដំណាក់កាលផ្សាំកូនក្អុក និង ដំណាក់កាលផ្សាំកូនកង្កែប ។ តាមការពិត ការបង្កាត់ភ្ញាស់-កង្កែប ទៅតាមបច្ចេកទេស ដូចមានការណែនាំក្នុងសៀវភៅនេះ មានភាពងាយស្រួល ដោយសារយើងមានបច្ចេកវិទ្យាថ្មីសមស្រប ដែលអាចយកទៅអនុវត្តមានប្រសិទ្ធភាព និង អាចធ្វើឱ្យការផលិតទទួលបានទិន្នផលខ្ពស់។ ម្យ៉ាងទៀត ទីផ្សារកូនកង្កែប និង កង្កែបសាច់កាន់តែល្អៗ ពីមួយថ្ងៃទៅមួយថ្ងៃ។

ចំណុចសំខាន់ៗដែលធ្វើឱ្យអ្នកបង្កាត់-ភ្ញាស់កង្កែប ទទួលបានជោគជ័យ គឺ ការជ្រើសរើសពូជបានល្អ ការធ្វើភ្លៀងសិប្បនិម្មិត ការផ្តល់ចំណីដែលមានគុណភាព ការលាងសំអាតបាតអាងរៀងរាល់មុនឱ្យកង្កែបស៊ីចំណី និង ការបំបែកវាតាមទំហំ ដើម្បីកុំឱ្យកង្កែបធំស៊ីកង្កែបតូច។ ដូច្នេះ អ្នកបង្កាត់ភ្ញាស់ គួរតែអនុវត្តតាមលំដាប់លំដោយនៃជំហានបច្ចេកទេស ដែលជាការចាំបាច់។

កន្លងមក ការចាប់កង្កែបពីធម្មជាតិមិនអាចផ្គត់ផ្គង់តម្រូវការគ្រប់គ្រាន់ទេ ដូច្នេះការលើកទឹកចិត្តឱ្យមានការប្រកបមុខរបរបង្កាត់-ភ្ញាស់កង្កែប ដើម្បីជម្រុញការចិញ្ចឹមកង្កែប មានសារសំខាន់ណាស់ ពីព្រោះ៖

- ➤ សាច់កង្កែបមានកម្រិតប្រូតេអ៊ីនខ្ពស់ និង ងាយរលាយដោយប្រដាប់រំលាយអាហារ ។
- ➤ ការបង្កាត់-ភ្ញាស់កង្កែបតាមបច្ចេកទេស អាចបង្កើនជីវភាពគ្រួសារ។
- ➤ ការបង្កាត់ភ្ញាស់កង្កែបអាចកាត់បន្ថយការចាប់កង្កែបពីធម្មជាតិ ដែលជាភ្នាក់ងារកំចាត់សត្វល្អិត និង ដង្កូវដែលស៊ីបំផ្លាញដំណាំ ។

- ម្យ៉ាងទៀត តាមរយៈការបង្កាត់-ភ្ញាស់កង្កែបនេះ អាចរួមចំណែក ជួយដល់អ្នកសិក្សាស្រាវជ្រាវនូវមុខវិជ្ជាដែលទាក់ទងនឹងបច្ចេកទេសបង្កាត់ភ្ញាស់កង្កែប ក្នុងគោលបំណងចង់កែលម្អបច្ចេកទេសឱ្យកាន់តែមានលក្ខណៈល្អប្រសើរឡើង។

## ២. លក្ខណៈជីវសាស្ត្រកង្កែប

### ២-១- ចំណាត់ថ្នាក់កង្កែប

ផ្នែក : Chordata

-ថ្នាក់ : Amphibia

-លំដាប់ : Anura

-អំបូរ : Ranidae

-ពូជ : Rana

-ប្រភេទ : H.tigerinus

-ឈ្មោះនៅប្រទេសកម្ពុជា : កង្កែបមាឌធំ

-ឈ្មោះភាសាបរទេស : Rana tigerita

### ២-២- ប្រភព និង ប្រភេទ

ពូជ Rana មានយ៉ាងតិចបំផុត ១៩ ប្រភេទកង្កែប។ កំណកំណើតប្រភេទកង្កែបដំបូង បានកើតឡើងលើផែនដីតាំងពី១៨០លានឆ្នាំមុនម្លេះ ។ គេប្រទះឃើញមានកង្កែប និង គីង្គក់ ប្រហែល ២.៧០០ប្រភេទ នៅលើផែនដី ហើយ ក្នុងចំណោម ប្រភេទកង្កែបទាំងនោះ មានពពួកកង្កែបជាច្រើន ដែលយើងនិយមបរិភោគ ។ ក្នុងនោះពូជកង្កែបមាឌធំ (កង្កែបកូប ឬ កង្កែបអូប) ដែលជាប្រភេទ ត្រូវបានណែនាំឱ្យចិញ្ចឹមដោយគម្រោង TSTD គឺ ត្រូវបានមកពីការបង្កាត់-ភ្ញាស់ រវាងមេ-បាកង្កែប ដែលចាប់ពីធម្មជាតិដែលយើងប្រទះឃើញមានក្នុងប្រទេសកម្ពុជា វៀតណាម ឡាវ ថៃ ជាដើម។

### ២-៣. ការវិវត្តន៍នៃកូនក្អុក

- ពងកង្កែបដែលបានផ្សំកំណើតរួច នឹងញាស់(ជាកូនក្អុក) បន្ទាប់ពីបានរយៈពេលពី ១៨ ទៅ ៣៦ ម៉ោង។

- ក្រោយពេលញាស់ កូនកង្កែប គឺ ជាកូនក្អុក ដែលមានស្រកី និង កន្ទុយ អាចហែល និងអាចដកដង្ហើមក្នុងទឹកបានដូចត្រី។
- ចាប់ពីមានអាយុ ២១ថ្ងៃ កូនក្អុកចាប់ផ្តើមដុះជើងក្រោយ ហើយបន្ទាប់មក ដុះជើងមុខ រីឯកន្ទុយវិញចាប់ផ្តើមរួញ និង ស្រកីចាប់ផ្តើមរួម ជាមួយគ្នានោះសួតចាប់ផ្តើមលូតលាស់ ។ ក្នុងដំណាក់កាលនេះ កូនក្អុក ចាប់ផ្តើមរៀនរស់នៅលើគោក។
- ចាប់ពីមានអាយុ ២៨ថ្ងៃទៅ កូនក្អុក រួញកន្ទុយអស់ ហើយចាប់ផ្តើមរស់នៅលើគោក ។
- ក្នុងករណីខ្លះកូនក្អុក អូសបន្លាយក្នុងការរួញកន្ទុយ ដោយសារចំណី ដែលបានផ្តល់ឱ្យ មិនសូវមានគុណភាព គុណភាពទឹកមិនសូវល្អ សីតុណ្ហភាពមិនសូវសមស្រប។




## ២-៤. ចរឹតស៊ីចំណី

- ក្នុងធម្មជាតិ កូនក្អុក ចូលចិត្តស៊ីសត្វប្លងតុង សារធាតុរលួយ ឬ សារធាតុសរីរាង្គ ព្រមទាំងកូនក្អុកគ្នាវា។
- ដោយឡែក កូនកង្កែប ឬ កង្កែបធំ ចូលចិត្តស៊ីចំណីរស់ និងមានចលនា ដូចជា ត្រី ក្តាម ជន្លេន កង្កែបផ្សេងៗដែលមានទំហំខ្លួនតូចជាងខ្លួនវា សត្វល្អិតគ្រប់ប្រភេទ...។ ដោយសារ កង្កែបអាចស៊ីគ្នាវា ដូច្នេះ អ្នកចិញ្ចឹមត្រូវជ្រើសរើសកូនកង្កែប ដែលមានទំហំប្រហាក់ប្រហែលគ្នា ដាក់ចិញ្ចឹមជាមួយគ្នា និង ផ្តល់

ចំណីដែលមានគុណភាព (ដែលមានកម្រិតប្រតេអ៊ីន យ៉ាងតិច៣០%) ឱ្យបានគ្រប់គ្រាន់ និងបានទៀងទាត់ ហើយឧស្សាហ៍បំបែកកង្កែប ទៅតាមទំហំ (បង្កែប) ប៉ុនៗគ្នា ដាក់ជាមួយគ្នា ឱ្យបានញឹកញាប់។

- ក្នុងធម្មជាតិ  កង្កែបមានចរិតស្វែងរកចំណីនៅពេលយប់ ឬ កន្លែងស្ងាត់ និង មិនចង្អៀតគ្នា ។ កង្កែបជាសត្វឆាប់ភ័យខ្លាច និង ឆាប់ផ្អើល។

- ចំពោះពូជកង្កែបដែលយកមកចិញ្ចឹម គឺបានមកពីការបង្កាត់ភ្ញាស់ ដូច្នេះវាមានការបន្សាំខ្ពស់ ក្នុងការរស់នៅកន្លែងតូចចង្អៀត និង ចេះស៊ីចំណីគ្រាប់ (ឬ ចំណីផ្សំ) ឬ ចំណីផ្សេងទៀត ដែលមិនមានចលនា ហើយវាអាចស៊ីចំណី នៅពេលថ្ងៃដោយមិនផ្អើល ។ នេះជាភាពងាយស្រួលដែលអាចឱ្យអ្នកចិញ្ចឹមទទួលបានជោគជ័យ។

- ក្នុងលក្ខខណ្ឌនៃការចិញ្ចឹម កង្កែបចូលចិត្តស៊ីចំណីគ្រាប់ ដែលអណ្តែត ។ ដោយឡែកចំពោះចំណីគ្រាប់ដែលទើរលើផ្នែកគោកនៃបាតអាង ឬ ចំណីស៊ីដែលមិនអស់ក្រោយមកលិច  កង្កែបចិញ្ចឹមមិនសូវស៊ីទេ ដូច្នេះដើម្បីកុំឱ្យខាតចំណី  ត្រូវបោះចំណីទៅលើទឹក។

- ដោយសារកង្កែបចិញ្ចឹម យើងបានបង្រៀនវាឱ្យចេះស៊ីចំណីច្រើនយ៉ាងដូច្នេះ យើងត្រូវឧស្សាហ៍ឱ្យវាស៊ីចំណីឆ្លាស់គ្នា រវាងចំណីពីរ ឬ បីមុខ តាមលទ្ធភាពដែលអាចរកបាន ជាជាងយើងឱ្យ វាចេះស៊ីតែចំណីគ្រាប់មួយមុខ ដែលមានតំលៃខ្ពស់ ។ បានន័យថា បើពេលណាយើងអាចរកចំណីផ្សេងៗ  ដែលមានតំលៃថោកជាង  ចំណីគ្រាប់ យើងគួរឱ្យកង្កែបស៊ីចំណីនោះ ដើម្បីកាត់បន្ថយថ្លៃចំណាយលើចំណី។




*រូបភាពបង្ហាញពីភាពខុសគ្នានៃមជ្ឈដ្ឋានរស់នៅរបស់កូនក្អុក និងកូនកង្កែប*

## ៣- ការជ្រើសរើសទីតាំងសម្រាប់សាងសង់អាង

- នៅជិតលំនៅដ្ឋាន
- កន្លែងដែលមានពន្លឺថ្ងៃ គ្រប់គ្រាន់
- មិនលិចទឹកនៅរដូវវស្សា
- នៅជិតប្រភពទឹកស្អាត




*រូបភាពបង្ហាញពីគំរូទីតាំងអាងចិញ្ចឹមកង្កែប ឬ បង្កាត់-ភ្ញាស់ កង្កែបដែលសមស្រប*

## ៤- ការសាងសង់អាង

### *៤-១- ប្រភេទអាង*

អាងសម្រាប់បង្កាត់-ភ្ញាស់កង្កែបអាចធ្វើពីស៊ីម៉ងត៍ ,តង់ប្លាស្ទិច ឬ អាងធ្វើពីកៅស៊ូប្លាស្ទិច។




*គំរូអាងសម្រាប់បង្កាត់-ភ្ញាស់ ឬ ចិញ្ចឹមកង្កែបធ្វើអំពីស៊ីម៉ងត៍ ក្រាលតង់*



គំរូអាងសម្រាប់បង្កាត់-ភ្ញាស់ ឬ ចិញ្ចឹមកង្កែបធ្វើពីតង់ប្លាស្ទិច

## ៤-២- ទំហំអាង

- *ក្នុងករណីអាងធ្វើអំពីស៊ីម៉ង់ត៍* យើងអាចធ្វើអាងបង្កាត់-ភ្ញាស់កង្កែបមានទំហំធំ ឬ តូចតាមលទ្ធភាព និងតាមទំហំដីដែលយើងមាន។
- *ក្នុងករណីអាងធ្វើអំពីតង់ ឬ ប្លាស្ទិច* យើងអាចធ្វើអាងបង្កាត់-ភ្ញាស់កង្កែប ទៅតាមទំហំកៅស៊ូតង់ ឬ កៅស៊ូប្លាស្ទិច។
- អាងបង្កាត់-ភ្ញាស់កង្កែប គួរមានកំពស់ប្រហែល ១ ម៉ែត្រ ឬ កំពស់ឥដ្ឋ៨ទៅ១០ជាន់ ដែលអាចធានាមិនឱ្យមេពូជកង្កែប លោតចេញបាន ។



គំរូអាងចិញ្ចឹមកង្កែប ដែលមានទំហំ ទៅតាមទំហំតង់ / កៅស៊ូប្លាស្ទិច

## ៤-៣- លក្ខណៈបាតអាង

‣ បាតអាងសម្រាប់បង្កាត់-ភ្ញាស់កង្កែប ត្រូវធ្វើឱ្យរាបស្មើ និង រលោង ដើម្បីបន្ថយភាពកកិតដែលអាចធ្វើឱ្យកង្កែប រលាកងាយរងនូវជម្ងឺ។

‣ បាតអាងបង្កាត់-ភ្ញាស់កង្កែប ត្រូវធ្វើឱ្យមានជំរាលបន្តិច ដែលល្មមត្រឹមតែអាចឱ្យទឹកហូរអស់ពីអាងក្នុងពេលយើងចង់ធ្វើការផ្លាស់ប្តូរទឹក ឬ លាងសំអាតបាតអាង។

‣ បាតអាងបង្កាត់-ភ្ញាស់កង្កែប គួរប្រើតង់ ឬ កៅស៊ូប្លាស្ទិច ពីព្រោះវាមានតំលៃថោក ងាយស្រួលធ្វើ និង វាមានភាពកកិតតិច។ នេះជាហេតុផលសំខាន់ សម្រាប់ការបង្កាត់-ភ្ញាស់កង្កែបដែលគម្រោង TSTD បានណែនាំឱ្យសិករអនុវត្តកន្លងមក ហើយទទួលបានជោគជ័យ។ ខាងក្រោម គឺជា គំរូអាងសម្រាប់បង្កាត់-ភ្ញាស់កង្កែប ដែលប្រើតង់ ឬ ប្លាស្ទិចធ្វើបាត ៖



រូបភាពបង្ហាញពីគំរូបាតអាងសម្រាប់បង្កាត់-ភ្ញាស់កង្កែប

## ៤-៤. ប្រព័ន្ធបញ្ចេញ-បញ្ចូលទឹក

### ក. ប្រព័ន្ធបញ្ចេញចោល

- បំពង់បង្ហូរទឹកចេញគួរប្រើបំពង់ទីបជ័រ ដែលមានទំហំ (មុខកាត់)ពី ៤០ ទៅ ៦០ មីលីម៉ែត្រ និង ត្រូវចងភ្ជាប់សំណាញ់បិទមុខ នៅចុងបំពង់ផ្នែកខាងក្នុងអាង ដើម្បីកុំឱ្យពងកង្កែប ឬ កូនក្តុក ចេញបាន។
- បំពង់បង្ហូរទឹកចេញ ត្រូវដាក់តម្រង់ទៅរកកន្លែង ដែលយើងចង់បង្ហូរទឹកដាក់។
- បំពង់បង្ហូរទឹកចេញ ត្រូវដាក់ត្រង់កន្លែងដែលទាបជាងគេ (នៃបាតអាង) ដើម្បីឱ្យអាចបង្ហូរទឹកអស់។



*រូបភាពបង្ហាញពីគំរូប្រព័ន្ធបញ្ចេញចោលរបស់អាងបង្កាត់ភ្ញាស់កង្កែប*

## ខ. ប្រព័ន្ធបញ្ចូលទឹក

- បំពង់បង្ហូរទឹកចូល អាចប្រើបំពង់ជ័រ (ទីប) ហើយបើបានរៀបជាប់(នឹងអាង)អចិន្ត្រៃយ៍ រឹតតែល្អ ពីព្រោះ ចំណេញពេលវេលា និងកំលាំងពលកម្មក្នុងការផ្លាស់ប្តូរទឹក។
- បំពង់បង្ហូរទឹកចូល គួរប្រើទំហំ (មុខកាត់) ពី ២១ ទៅ ៤០ មីលីម៉ែត្រ ពីព្រោះងាយស្រួលក្នុងការប្រើប្រាស់ និង អាចចំណេញទឹក និង សោហ៊ុយតិច ក្នុងការបូមលាងសំអាត និង ផ្លាស់ប្តូរទឹក ហើយម៉្យាងទៀត វាមិនធ្វើឱ្យមានការប៉ះទង្គិចគ្រាប់ពង ឬ កូនក្អុកខ្លាំង។
- បំពង់បង្ហូរទឹកចូល ត្រូវដាក់ខ្ពស់ជាងមាត់អាងបន្តិច និងដាក់ត្រង់កន្លែងដែលមានបាតខ្ពស់ជាងគេ ដើម្បីងាយស្រួលក្នុងការលាងសំអាតបាតអាង ឱ្យបានស្អាតល្អ ។
- គួរចងចាំថា ក្នុងករណីប្រព័ន្ធបញ្ចូលទឹករងនូវកំដៅថ្ងៃ ឬ ទឹក ដែលយកមក ប្រើសម្រាប់ផ្លាស់ប្តូរ ក្តៅពេក យើងមិនអាច ប្រើទឹកនោះបានទេ ព្រោះវាអាចធ្វើឱ្យកូនក្អុក កូនកង្កែប ងាប់។ ជាដំណោះស្រាយ យើងត្រូវបាញ់ ឬ បង្ហៀរទឹក ដែលក្តៅពេកនោះ ចេញក្រៅអាងឱ្យអស់សិន ទើបយកទឹក (មិនក្តៅ) យកមកប្រើ។

 

*រូបភាពបង្ហាញពីគំរូប្រព័ន្ធបញ្ចូលទឹករបស់អាងបង្កាត់-ភ្ញាស់កង្កែប*

### ៤-៥. ការធ្វើដំបូលអាង

▸ ដំបូលអាងបង្កាត់-ភ្ញាស់កង្កែប គួរធ្វើអំពីស្បែម្លប់ ដើម្បីកាត់បន្ថយកំដៅថ្ងៃ[1] ។ ស្បៃម្លប់ វាមានលក្ខណៈល្អត្រង់ថា វាអាចប្រើបានយូរឆ្នាំ ស្រាល ស្ងិត មិនជក់ទឹក អាចទប់កំដៅ មិនឱ្យក្តៅខ្លាំងពេក។

▸ ស្បៃម្លប់ ឬ ស្បៃកាត់បន្ថយកំដៅថ្ងៃ ដែលយកមកធ្វើដំបូល និង កៅស៊ូតង់ គួរជ្រើសរើសយកពណ៌បៃតង ឬ ពណ៌ខៀវខ្ចី ដើម្បីឱ្យកង្កែបមានពណ៌ស្រស់ស្អាត។

▸ ដំបូល មិនគួរធ្វើទាបពេកទេ ពីព្រោះធ្វើឱ្យកង្កែបក្តៅខ្លាំង ។ កំពស់សមស្រប គឺ ប្រហែល ២ម៉ែត្រ។



*រូបភាពបង្ហាញពីដំបូលអាងបង្កាត់ភ្ញាស់ ឬ ចិញ្ចឹមកង្កែប*

## ៥- ការជ្រើសរើស និងការថែទាំមេពូជ

### ៥-១- ការជ្រើសរើសមេពូជ

កង្កែបដែលត្រូវជ្រើសរើសយកមកធ្វើជាមេពូជ (ញី ឈ្មោល[2]) ត្រូវមានលក្ខណៈដូចខាងក្រោម៖

✧ អាយុយ៉ាងច្រើន ពីរឆ្នាំ
✧ មានកាយសម្បទាគ្រប់គ្រាន់ និងមានសុខភាពល្អ
✧ មេមានទម្ងន់ពី ៣០០ ទៅ ៧០០ ក្រាម (៧ ខាំ) ក្នុង ១ក្បាល
✧ ឈ្មោលមានទម្ងន់ពី ២០០ ទៅ ៣០០ក្រាម (៣ខាំ) ក្នុង ១ ក្បាល

### ៥-២- ការគ្រប់គ្រង និងការថែទាំមេពូជ

✧ ក្រោយពេលបង្កាត់រួច យើងត្រូវចាប់មេពូជទៅដាក់កន្លែងដោយឡែកពីគ្នារវាងញី និងឈ្មោល។

[1] តែកុំឱ្យត្រជាក់ពេក (ម្លប់ខ្លាំងពេក) ព្រោះធ្វើឱ្យកង្កែប មិនសូវស៊ីចំណី។

[2] កង្កែបញី ពេញវ័យ មានទំហំខ្លួនធំជាងកង្កែបឈ្មោល។

✧ ធ្វើការបំប៉នមេពូជដែលបានធ្វើការបង្កាត់ហើយ ដើម្បីទុកបង្កាត់នៅចុងរដូវ (ឬ រដូវបន្ទាប់ទៀត)។

✧ ជាទូទៅ យើងត្រូវធ្វើការបំបែកញី និងឈ្មោលដោយឡែកពីគ្នាមុនរដូវបន្តពូជ (មុន ខែមេសា) ដើម្បីជៀសវាង ការធ្វើស្វ័យបង្កាត់ ដោយយើងមិនទាន់បានរៀបចំអាងបង្កាត់ បានល្អជាមុន។







*រូបភាពបង្ហាញពីការបំបែកមេពូជកង្កែបចេញពីគ្នា*

## ៦- បច្ចេកទេសបង្កាត់ ភ្ញាស់កង្កែប

### *៦-១-រដូវកាល និងពេលវេលាបង្កាត់-ភ្ញាស់*

✧ រដូវបង្កាត់ ភ្ញាស់បង្កែបដូចគ្នា នឹងត្រីដែរ គឺជាទូទៅ នៅចន្លោះពី ចុងខែមិនា ដល់ ដើមខែវិច្ឆិកា

✧ ពេលវេលាសម្រាប់ធ្វើការបង្កាត់ ភ្ញាស់ដែលសមស្រប គឺនៅចន្លោះម៉ោង៣ ដល់ ម៉ោង៥ រសៀល។

### *៦-២-បច្ចេកទេសបង្កាត់ ភ្ញាស់*

*៦-២-១-ការបង្កាត់តាមបែបធម្មជាតិ*

✧ មិនមានការប្រើ អ័រម៉ូន

✧ សមាមាត្រមេពូជ: មេមួយ ទល់ ឈ្មោលមួយ។

✧ ដង់ស៊ីតេមេពូជ: មួយគូ (ញីឈ្មោល) ក្នុង ផ្ទៃអាង ១ម៉ែត្រការេ

✧ ធ្វើការបាញ់ទឹកចាប់ពីពេលព្រលប់ដល់ម៉ោង ១០ ឬ ម៉ោង ១១ យប់។

✧ គួរអនុវត្តការបាញ់ទឹកជារឿយៗ រហូតដល់កង្កែបធ្វើការជម្រុះពង

✧ ពេលព្រឹកឡើង ត្រូវចាប់មេពូជចេញពីអាងបង្កាត់ទាំងអស់ និងត្រូវដាក់មេពូជដែលបានជម្រុះពង រួច ដាក់ផ្សេងពីមេពូជដែលមិនទាន់ជម្រុះពង។

សំគាល់៖ ការបង្កាត់ពូជតាមបែបធម្មជាតិនេះ ភាគរយនៃមេដែលជម្រុះពងទាប ពីព្រោះមេពូជដែលបានជ្រើសរើស យកមកបង្កាត់នោះ ភាគរយមេដែលស្ថិតក្នុងដំណាក់កាលអាចជម្រុះពងបាន មានចំនួនតិច។

## ៦-២-២-ការបង្កាត់តាមបែបពាក់កណ្តាលសិប្បនិម្មិត

✧ ការបង្កាត់តាមបែបពាក់កណ្តាលសិប្បនិម្មិត មានការប្រើ អ័រម៉ូន
✧ សមាមាត្រមេពូជៈ មេមួយ ទល់ ឈ្មោលមួយ។
✧ ដង់ស៊ីតេមេពូជៈ មួយគូ (ញីឈ្មោល) ក្នុងផ្ទៃអាង ១ ម៉ែត្រការ៉េ
✧ ធ្វើការបាញ់ទឹកចាប់ពីពេលក្រោយចាក់ អ័រម៉ូន ដល់ម៉ោង ១០ ឬ ម៉ោង ១១ យប់។
✧ ពេលព្រឹកឡើង ត្រូវចាប់មេពូជចេញពីអាងបង្កាត់ទាំងអស់ និងត្រូវដាក់មេពូជដែលបានជម្រុះពងរួច ដាក់ផ្សេងពីមេពូជដែលមិនទាន់ជម្រុះពង។

សំគាល់៖ ការបង្កាត់ពូជតាមបែបពាក់កណ្តាលសិប្បនិម្មិត អាត្រាគរយនៃមេដែលជម្រុះពង ខ្ពស់ជាងតាមបែបធម្មជាតិ ពីព្រោះមេពូជដែលបានជ្រើសរើសយកមកបង្កាត់នោះជាមេពូជដែលបានចាក់អ័រម៉ូន ជម្រុញភាពពេញវ័យនៃពងរបស់កង្កែប និង ជម្រុញការជម្រុះពង។



រូបភាពបង្ហាញពីការបំបែកមេពូជកង្កែបចេញពីគ្នា

## ៦-៣-ប្រភេទ និងរបៀបប្រើប្រាស់ អ័រម៉ូន

### ៥-៣-១-ប្រភេទ អ័រម៉ូន

អ័រម៉ូនដែលអាចយកមកចាក់មេពូជកង្កែបមានច្រើនប្រភេទ ដូចខាងក្រោម៖

☞ ស៊ុបព្រីហ្វាក់ (Suprefact) ដែលត្រូវប្រើជាមួយថ្នាំគ្រាប់ ម៉ូទីលីល្យ៉ូម (Motilium)






☞ អូវ៉ាព្រីម (Ovaprim)







☞ ក្រពេញខួរក្បាលទី៣ របស់ត្រីកាបសាមញ្ញ ឬ ត្រីរ៉ូហ៊ូ (Pituitary Gland)



រូបភាពបង្ហាញពីរបៀបកាប់យកក្រពេញខួរក្បាលត្រី

☞ ហះ សេ ស្សេ (HCG)




ក្នុងចំណោម អ័រម៉ូន ខាងលើ គឺ ប្រភេទអ័រម៉ូន ស៊ុបព្រីហ្វាក់ (Suprefact) ដែលមានការប្រើប្រាស់ចំណេញ និងមានប្រសិទ្ធភាពនិងជាប្រភេទអ័រម៉ូន ដែលមានការណែនាំជាទូទៅដល់កសិករឱ្យប្រើប្រាស់ក្នុងការចាក់បង្កាត់ត្រីគ្រប់ប្រភេទ និងកង្កែបផងដែរ។

## ៦-៣-២-របៀបប្រើប្រាស់អ័រម៉ូន ស៊ុបព្រីហ្វាក់ និង ម៉ូទីលីល្យ៉ូម

### ៦-៣-២-១-កម្រិតអ័រម៉ូនប្រើប្រាស់

- ស៊ុបប្រេហ្វាក់ ពី ១០ ទៅ ១៥ មីក្រូក្រាម (µg) + ម៉ូទីល្យ៉ូម ១០ មីលីក្រាម (mg) សម្រាប់ចាក់កង្កែបមេ (ទម្ងន់សរុប) ១ គីឡូក្រាម។

- ស៊ុបប្រេហ្វាក់ ៥ មីក្រូក្រាម (µg) + ម៉ូទីល្យ៉ូម ១០ មីលីក្រាម (mg) សម្រាប់ចាក់កង្កែបឈ្មោល ១គីឡូក្រាម

### ៦-៣-២-២-ពេលវេលាចាក់អ័រម៉ូន

✧ ពេលវេលាសមស្របសម្រាប់ចាក់អ័រម៉ូន គួរធ្វើនៅម៉ោង ៣ ទៅ ម៉ោង ៥ រសៀល។
✧ ជាទទូទៅកង្កែបអាចជម្រុះពងនៅម៉ោង ៩ រហូតដល់ជិតភ្លឺ។
✧ ក្រោយពេលជម្រុះពងរួចពងកង្កែប នឹងញាស់ចាប់ពី ១៨ម៉ោង ទៅ ៣៦ម៉ោង។

ល្បឿនលូតលាស់នៃអំប្រីយ៉ុង គឺអាស្រ័យ លើសីតុណ្ហភាពទឹក។ សីតុណ្ហភាពសមស្របសម្រាប់ការភ្ញាស់ពង គឺ ពី ២៥ ទៅ ២៧ ដឺក្រេសេ។

## ៦-៤-ការធ្វើបន្តទឹកភ្លៀងសិប្បនិម្មិត

✧ ការធ្វើភ្លៀងសិប្បនិម្មិតគឺដើម្បីជម្រុញឱ្យមានអារម្មណ៍ក្នុងការបង្កាត់។
✧ ការធ្វើភ្លៀងសិប្បនិម្មិត គឺ ធ្វើនៅក្រោយចាក់អ័រម៉ូនរួច និង ឈប់នៅម៉ោង ៩ ឬ ១០យប់។
✧ក្នុងករណីមានភ្លៀង យើងមិនចាំបាច់ធ្វើភ្លៀងសិប្បនិម្មិតទេ។

## ៦-៥-ការភ្ញាស់ពងកង្កែប

- កំពស់ទឹកក្នុងភ្ញាស់ ៣ ទៅ ៥ សង់ទីម៉ែត្រ។
- ក្នុងករណីមានភ្លៀង គួរគ្របអាងភ្ញាស់ ដើម្បីកុំឱ្យត្រូវថ្ងៃ។
- ក្រោយពេលញាស់រយៈពេល ពី ២ ទៅ ៣ ថ្ងៃត្រូវផ្តល់ចំណី ឱ្យកូនក្អុកទើបញាស់។

## ៧- បច្ចេកទេសផ្សាំកូនក្អូក និងកូនកង្កែប

### *៧-១-ប្រភេទចំណី និងការផ្តល់ចំណី*

- រយៈពេលពី ៥ ទៅ ៧ ថ្ងៃដំបូងឱ្យស៊ីពងក្រហមស្ងោ ២០ភាគរយ នៃទម្ងន់ខ្លួន ពី ៥ ទៅ ៦ដង ក្នុង១ថ្ងៃ។
- រយៈពេលពី ៧ ទៅ ២១ថ្ងៃបន្ទាប់ ត្រូវឱ្យស៊ីចំណីគ្រាប់ ចំនួនពី ១០ ទៅ ១៥ភាគរយ នៃទម្ងន់ខ្លួន (កូនក្អូក) ចំនួន ពី ៥ ទៅ ៦ដង ក្នុង១ថ្ងៃ។
- រយៈពេលពី ២១ ទៅ ៣០ថ្ងៃបន្ទាប់ ត្រូវឱ្យស៊ីចំណីគ្រាប់ ចំនួនពី ៥ ទៅ ១០ភាគរយ នៃទម្ងន់ខ្លួន (កូនក្អូក/កូនកង្កែប) ចំនួនពី ៤ ទៅ ៥ ដងក្នុង១ថ្ងៃ។




*រូបភាពបង្ហាញពីចំណីគ្រាប់សម្រាប់ឱ្យកូនក្អូក ឬ កូនកង្កែប ស៊ី*

### *៧-២-ការគ្រប់គ្រងគុណភាពទឹក*

- ផ្លាស់ប្តូរទឹកយ៉ាងយូរ ២ថ្ងៃម្តង ដើម្បីកាត់បន្ថយជាតិ អាម៉ូនីញាក់ (កកើតពីកាកសំណល់ ដែលស៊ីមិនអស់ ក្នុងអាង)។
- ក្នុងករណីទឹកដែលយកមកប្រើជាទឹកម៉ាស៊ីនហើយមានក្លរច្រើន ឬ ទឹកអណ្តូងចេញដែលមានក្លិនឆ្អួលខ្លាំង ឬ មានរសជាតិភ្លាវខ្លាំង ត្រូវស្តុកទុកក្នុងអាង ឬ ស្រះ ២ ទៅ ៣ថ្ងៃសិន មុននឹងយកទៅប្រើ។
- ក្នុងករណីប្រើទឹកលើដី ត្រូវដឹងថាទឹកនោះគ្មានជាតិពុល ឬ ទឹកស្អុយ ដូចជា ទឹកស្រែដែលទើបតែបាញ់ថ្នាំពុលហើយថ្មីៗ ឬ ទឹកស្រះដែលបានសំអាតទឹកជាមុនជាដើម។

# ៨. ការតាមដានកម្រិតលូតលាស់ និង អត្រាគង់វង្សជាមធ្យមរបស់កង្កែបចិញ្ចឹម

## ៨-១. ការតាមដានកម្រិតលូតលាស់ជាមធ្យមរបស់កង្កែប

យើងអាចតាមដានការលូតលាស់កង្កែបដែលយើងចិញ្ចឹម តាមរយៈការថ្លឹងកង្កែប ចាប់ពី១០០ ក្បាល ហើយយកទម្ងន់សរុបនៃកង្កែបដែលបានថ្លឹងនោះ ចែកនឹង ចំនួនក្បាលសរុបដែលបានថ្លឹង។ ផលចែកដែលទទួលបាននោះ គឺជា ទម្ងន់ជាមធ្យមរបស់កង្កែប ១ ក្បាល ។ ការតាមដានការលូតលាស់របស់កង្កែប អាចធ្វើរៀងរាល់មួយខែម្តង ដោយប្រើដៃចាប់ផ្ទាល់ មុននឹងឱ្យចំណី ហើយធ្វើដោយរហ័ស ដើម្បីកុំឱ្យកង្កែប អន់។

ខាងក្រោមនេះ គឺជា រូបមន្ត សម្រាប់គណនារកកម្រិតលូតលាស់ជារបស់កង្កែប ៖

| |
|---|
| កម្រិតលូតលាស់ ឬ ទម្ងន់កង្កែបជាមធ្យម (ក្រាម) = ទម្ងន់កង្កែបសរុប (ក្រាម) *ចែកនឹង* ចំនួនកង្កែបសរុប (ក្បាល) |

## ៨-២. ការតាមដានអត្រាគង់វង្ស

គេអាចតាមដានអត្រាគង់វង្ស (រស់ធំ ដល់ពេលចាប់) របស់កង្កែបចិញ្ចឹម ដោយធ្វើការចាប់រាប់កង្កែបក្នុងអាងទាំងអស់។ រាប់ឃើញចំនួនប៉ុន្មាន យកវាមក គុណនឹង១០០ ហើយ ចែកនឹង ចំនួនកង្កែបទាំងអស់ដែលបានដាក់ចិញ្ចឹម។ ផលចែកចុងក្រោយគឺ ជាអត្រាគង់វង្ស គិតជាភាគរយ (%)។

ជាទូទៅ ការគិតរកអត្រាគង់វង្សនៃកង្កែបចិញ្ចឹម គឺ ធ្វើនៅពេលប្រមូលផល ។ កាលណាត្រាគង់វង្សនៃសត្វចិញ្ចឹមកាន់តែទាប នោះលទ្ធភាពចំណេញនៃការចិញ្ចឹមកាន់តែទាប ឬក៏ អាចខាត។

ការតាមដានដឹងពីអត្រាគង់វង្ស អាចឱ្យអ្នកចិញ្ចឹមឆ្លុះបញ្ចាំងអំពីកំហុសឆ្គងនៃការអនុវត្តន៍បច្ចេកទេសរបស់ខ្លួនកន្លងមក និង ធ្វើឱ្យអ្នកចិញ្ចឹម អាចធ្វើការកែលំអឡើងវិញសម្រាប់ការចិញ្ចឹមលើកក្រោយ ដើម្បីធ្វើយ៉ាងណាឱ្យទទួលបានអត្រារស់គង់វង្ស កាន់តែខ្ពស់ ដែលនាំឱ្យការចិញ្ចឹម កាន់តែបានចំណេញច្រើន។

ខាងក្រោម គឺជារូបមន្ត សម្រាប់គណនាអត្រាគង់វង្សរបស់កង្កែប

| |
|---|
| អត្រាគង់វង្ស (%) = ចំនួនកង្កែបនៅសល់សរុប (ក្បាល) × **១០០** / ចំនួនកង្កែប ដែលបានដាក់ចិញ្ចឹម (ក្បាល) |

# ៩. ប្រភេទជម្ងឺ និង ប្រភេទថ្នាំសម្រាប់ព្យាបាល

## *៩-១. ប្រភេទជម្ងឺ និងការការពារ*

ជម្ងឺរបស់កង្កែបចិញ្ចឹម ច្រើនបង្កឡើងដោយសារមជ្ឈដ្ឋានទឹក ដែលវារស់នៅ មិនស្អាត និង គុណភាពចំណីមិនល្អ ព្រមទាំងការមិនសូវធ្វើអនាម័យបាតអាង បានស្អាតល្អ ជាប្រចាំ។ ក្នុងនោះជម្ងឺកង្កែប ដែលយើងច្រើនជួបប្រទះ គឺ ជម្ងឺហើមពោះ និង ជម្ងឺរលាកស្បែក។

*ក. ជម្ងឺហើមពោះ*

- កង្កែបមានពោះរីកធំ មិនស្រូវមានចលនា មិនសូវស៊ីចំណី។
- កង្កែបមានជម្ងឺហើមពោះមួយចំនួន មានលានក្រសាលគូទ ចេញមកក្រៅ ។







*មូលហេតុ:*

- បណ្តាលមកពី ពពួក *ប្រូតូសូអ៊ែ* ដូចជា ពពួកដង្កូវពោះវៀន
- កង្កែបស៊ីចំណីផ្អូម (ចំណីសល់) ឬ ស៊ីចំណីច្រើនពេក ហើយមិនអាចបញ្ចេញលាមក។
- ទឹកក្នុងអាងចិញ្ចឹមឡើងកខ្វក់ បណ្តាលពីមិនបានផ្លាស់ប្តូរទឹកបានត្រឹមត្រូវ ទៀងទាត់ ។

*វិធានការណ៍ការពារ:*

- ត្រូវឧស្សាហ៍ផ្លាស់ប្តូរទឹកស្អាត ឱ្យបានទៀងទាត់ និង សំអាតបាតអាង ឱ្យបានញឹកញាប
- ត្រូវលាយថ្នាំអង់ស៊ីម (Enzymes) ឬ ឡាក់តូបាក់ស៊ីឡឹស (Lactobacillus) (ពី២ ទៅ ៣ ក្រាម ក្នុង១គីឡូក្រាម ចំណី) ប្រើរយៈពេលពី ៤ ទៅ ៥ថ្ងៃ ម្តង។

## ខ. ជម្ងឺរលាកស្បែក

- ✧ កង្កែបមិនសូវស៊ីចំណី ធ្វើចលនាយឺតៗ។
- ✧ នៅលើខ្លួនផ្នែកពោះ និង ជើងផ្នែកខាងក្រោមរបស់វា មានស្នាមជាំព៌ណក្រហម ជាពិសេស នៅលើប្រអប់ជើងទាំងបួន ។ បើយើងវះវា យើងឃើញសាច់របស់វាមានព៌ណក្រហមជាំ។





### មូលហេតុ:

- ➤ បណ្តាលមកពីបាក់តេរី ឈ្មោះ អាអេរ៉ូម៉ូណាស់ អ៊ីដ្រូភីឡា(Aeromonas **Hydrophila)**
- ➤ បាតអាងចិញ្ចឹមកង្កែបមានលក្ខណៈគ្រើមខ្លាំង (អាងស៊ីម៉ង់ត៍) ។
- ➤ ទឹកក្នុងអាងចិញ្ចឹម មានភាពកខ្វក់ខ្លាំង ដែលធ្វើឱ្យមេរោគ អាចជ្រាបចូលខ្លួនកង្កែប តាមរយៈស្នាមរបួស ដែលអាចធ្វើឱ្យកង្កែបមានជម្ងឺ។

### វិធានការណ៍ការពារ:

- ➤ ត្រូវឧស្សាហ៍ផ្លាស់ប្តូរទឹក ឱ្យបានទៀងទាត់ និង រក្សាគុណភាពទឹកក្នុងអាង ឱ្យបានស្អាតល្អ ។
- ➤ ផ្ទៃបាតអាង ត្រូវមានលក្ខណៈរលោង
- ➤ លាងសំអាតបាតអាងចិញ្ចឹម បានញឹកញាប់។

## ៩-២. ប្រភេទថ្នាំសម្រាប់ព្យាបាល

ទាក់ទងនឹងការព្យាបាល យើងអាចប្រើប្រភេទថ្នាំពេទ្យ ឬ អាចប្រើថ្នាំផ្សំពីរុក្ខជាតិ ។ ជាក់ស្តែង នៅក្នុងកម្មវិធីធ្វើបង្ហាញពីការចិញ្ចឹមកង្កែបក្នុងអាងរបស់គម្រោង TSTD យើងបានណែនាំឱ្យកសិករប្រើតែប្រភេទថ្នាំ ដែលផ្សំពីធាតុផ្សំប្រភពពីរុក្ខជាតិ ចំនួន ៣ ឬ ៤ មុខ ដែលអាចងាយរកបាន នៅតាមមូលដ្ឋាននិមួយៗ ។

### ៩-២-១. ប្រភេទថ្នាំផ្សំពីរុក្ខជាតិ

#### ក). គ្រឿងផ្សំសម្រាប់ ព្យាបាលជម្ងឺហើមពោះ



- មើមល្មៀត ចំនួន ២ គីឡូក្រាម



- គល់ស្លឹកគ្រៃ ចំនួន ២ គីឡូក្រាម



- ស្លឹកម្រះព្រៅ ចំនួន ២ គីឡូក្រាម



- ស្លឹកវល្លិ៍ ត្រចៀកក្រាញ់ ចំនួន ២ គីឡូក្រាម

**<u>វិធីផ្សំ</u>**

- លាងសំអាតវត្ថុធាតុដើម (ធាតុផ្សំ) ទាំងអស់ រួចសំដិលទុកឱ្យស្រស់ទឹក។
- បុកវត្ថុធាតុដើម រួចលាយច្របល់ចូលគ្នា ឱ្យបានសព្វល្អ។
- **<u>ផ្អាប់</u>**វត្ថុធាតុដើម ដែលច្របល់ចូលគ្នា រួចទុករយៈពេល ពី៥ ទៅ ៧ថ្ងៃ។ ក្នុងកំឡុងពេលនេះ ទឹកថ្នាំជោរចេញពីវត្ថុធាតុដើមទាំងនេះ ដែលយើងហៅថា *ថ្នាំផ្សំពីរុក្ខជាតិ* សម្រាប់ព្យាបាល *ជម្ងឺហើមពោះ។*

## *វិធីប្រើ និងរយៈពេលប្រើ*

- ប្រើទឹកថ្នាំ ៣ ទៅ ៥ មីលីលីត្រ  លាយជាមួយចំណីគ្រាប់ ចំនួន៥ គីឡូក្រាម។
- សំដិលចំណីដែលបានលាយជាមួយថ្នាំរួច ហើយទុកឱ្យស្ងួត។
- យកចំណីដែលបានលាយថ្នាំ ឱ្យកង្កែបស៊ីរយៈពេល ពី២ ទៅ ៣ថ្ងៃ ជាប់គ្នា ។ ក្រោយរយៈពេលពី ៧ទៅ ១០ថ្ងៃ គួរឱ្យម្តងទៀត។

## *ខ). គ្រឿងផ្សំសម្រាប់ ព្យាបាលជម្ងឺរលាកស្បែក*



☛ *សំបកអង្គារដើមដី* ចំនួន ២ គីឡូក្រាម



☛ *អំបិលក្រួស* ចំនួន ០,៣ គីឡូក្រាម (៣ ខាំ)




☛ *ទឹកស្អាត* ចំនួន ១០ លីត្រ

## *វិធីផ្សំ និង របៀបប្រើ*

- បុក ឬ ដំសំបកដើមអង្គារដី (ចំនួន ២គីឡូ) ឱ្យទក់ រួចយកទៅត្រាំទឹកស្អាត ចំនួន ១០លីត្រ។
- ត្រាំវា រយៈពេល ពី២ ទៅ ៣ថ្ងៃ។
- យកទឹកដែលបានត្រាំសំបកអង្គារដី ដែលមានចំណុះ១០លីត្រនោះ  មកលាយជាមួយនឹង អំបិលក្រួសចំនួនពី ២ ទៅ ៣ខាំ ឱ្យសព្វល្អ  រួចយកទៅបាច់ ឬ ប្រស់ទៅលើកង្កែបផ្ទាល់ ។ ប្រហែល ១០នាទីក្រោយមក យើងបាញ់ទឹកធម្មតាលាងសំអាតវាវិញ ។ ធ្វើតាមវិធីនេះ រវាងពី ១៥ ទៅ ៣០ថ្ងៃ ម្តង។

### ៩-២-២. ប្រភេទថ្នាំពេទ្យ សម្រាប់ព្យាបាល

#### ក). ជម្ងឺហើមពោះ

- ប្រើ មេត្រូនីដាសុល (Metronidazle) ចំនួនពី ២ ទៅ ៣ក្រាម សម្រាប់ចំណី ១ គីឡូក្រាម ឱ្យកង្កែបស៊ី ពី ៣ ទៅ ៥ថ្ងៃ។
- ឬ ប្រើ ស៊ុលហ្វាឌីយ៉ាស៊ីន (Sulphadiazin) ចំនួន ពី៤ ទៅ ៥ក្រាម សម្រាប់ចំណី ១ គីឡូក្រាម ឱ្យស៊ី ពី៣ ទៅ ៥ ថ្ងៃ។

#### ខ). ជម្ងឺរលាកស្បែក

- ប្រើ អុកស៊ីតេត្រាស៊ីគ្លីន (Oxytetracycline) ចំនួន ពី២ ទៅ ៣ក្រាម សម្រាប់ចំណី ១គីឡូក្រាម ឱ្យស៊ី ពី៣ ទៅ ៥ថ្ងៃ។
- ឬ ប្រើណូហ្លូសាស៊ីន (Norfloxaxine) ចំនួន ៥ក្រាម សម្រាប់ចំណី ១គីឡូក្រាម ឱ្យស៊ី ពី ៣ ទៅ ៥ថ្ងៃ ។

## ១០- ការប្រមូលផល

ជាទូទៅ ការប្រមូលផលកូនពូជកង្កែប គឺមានរយៈពេលយ៉ាងយូរ ៤៥ថ្ងៃ ចាប់ពីពេលកូនក្អុកញាស់។ បើយើងបន្តបំប៉នកូនកង្កែបយូរជាងហ្នឹងនោះកូនកង្កែបពូជនឹងធំជ្រុល ដែលត្រូវលក់តំលៃខ្ពស់ ជាងកូនពូជដែលមានអាយុក្រោម៤៥ថ្ងៃ ដូច្នេះ អាចពិបាករកអ្នកទិញ។ ជាទូទៅ គួរប្រមូលផលកូនពូជកង្កែបចាប់ពីអាយុ ពី ៤០ទៅ ៤៥ថ្ងៃ ដែលមានទម្ងន់ប្រហែល ពី១០ ទៅ ១៦ក្រាម ក្នុង១ក្បាល។

ក្នុង១ឆ្នាំ យើងអាចដាក់បង្កាត់ភ្ញាស់កង្កែបបានច្រើនដងតាមតម្រូវការទីផ្សារ និងតាមចំនួនមេពូជដែលយើងមាន។ កន្លងមក កូនកង្កែបអាចលក់បានតំលៃ ៥០០រៀលក្នុង១ក្បាល ចំណែកឯ កង្កែបសាច់អាចលក់បានតំលៃ ពី ៨.០០០ទៅ ១២.០០០រៀល ក្នុង ១គីឡូក្រាម។ លើកលែងតែប្រមូលផល នៅចន្លោះខែ វិច្ឆិកា ដល់ ខែមករា ដែលកង្កែបចិញ្ចឹមលក់មិនសូវបានថ្លៃ ដោយសារនៅសំបូរកង្កែបចាប់ពីធម្មជាតិ និងត្រីច្រើន។



រូបភាពបង្ហាញអំពីពូជកង្កែបដែលមានទំហំល្មមលក់

# ១១-ការសន្និដ្ឋាន និង សំណូមពរ

## ១១-១- ការសន្និដ្ឋាន

ការផលិតពូជកង្កែបលក់ អាចឱ្យអ្នកចិញ្ចឹមមានលទ្ធភាពចំណេញច្រើនដោយសារកូនកង្កែបស៊ីចំណីអស់តិច។ ម្យ៉ាងទៀត ការផលិតពូជកង្កែបប្រើពេលខ្លី និង ធ្វើក្នុងទីកន្លែងតូចចង្អៀតបាន។ មិនតែប៉ុណ្ណោះ កូនកង្កែបអាចលក់បានតំលៃខ្ពស់ និង ហើយបើសល់ អាចទុកបំប៉នយកសាច់សម្រាប់លក់ ដោយមិនចាំបាច់ចំណាយទិញពូជ។

ដូច្នេះយើងអាចសន្និដ្ឋានបានថា ការផលិតពូជកង្កែបមានភាពសមស្របទៅនឹងកសិករដែលចង់ចិញ្ចឹមតែគាត់មិនមានដីធំហើយគាត់មានសូវមានធនធានច្រើន ។

បច្ចេកទេសបង្កាត់ភ្ញាស់កង្កែបក្នុងអាងតង់មានលក្ខណៈងាយៗ និង មានការចំណាយក្នុងការផលិតតិចអាចឱ្យកសិករងាយទទួលយកទៅអនុវត្តបាន និង អាចធ្វើឱ្យកសិករទទួលបានទិន្នផលខ្ពស់។

## ១១-២- សំណូមពរ

ដើម្បីធ្វើការកែលំអលក្ខណៈបច្ចេកទេស និង ទង្វើខុសឆ្គងមួយចំនួនរបស់អ្នកបង្កាត់ភ្ញាស់កង្កែបដែលបានអនុវត្តកន្លងមក យើងខ្ញុំក្នុងនាមជាអ្នករៀបចំចងក្រងសៀវភៅនេះ សូមធ្វើការកត់សំគាល់ និង សំណូមពរដល់អ្នកបង្កាត់ភ្ញាស់កង្កែបទាំងអស់ ដូចខាងក្រោម៖

- គួរតែធ្វើការសាងសង់ដោយការធ្វើឱ្យបាតអាងមានភាពរលោងសម្រាប់ ការបង្កាត់ភ្ញាស់កង្កែប ដើម្បីឱ្យកង្កែបជៀសផុតពីជម្ងឺរលាក និង ជម្ងឺផ្សេងៗទៀត។
- ត្រូវតែធ្វើការផ្លាស់ប្តូរទឹកឱ្យបានទៀងទាត់ សម្រាប់អាងផ្សាំកូនក្អុក។
- ត្រូវផ្តល់ចំណីដែលមាន ប្រូតេអ៊ីន ប្រហាក់ប្រហែល ៤០% ឱ្យកូនក្អុកស៊ីបានគ្រប់គ្រាន់ និង ទៀងទាត់។
- ត្រូវលាងសំអាតបាតអាងនិងផ្លាស់ប្តូរទឹកទៀងទាត់ដើម្បីឱ្យកង្កែបមានសុខភាពល្អ និងឆាប់ធំ។
- ធ្វើការចាប់បំបែកកូនកង្កែប ពីកូនក្អុក បន្ទាប់ពីវារួញកន្ទុយជិតអស់។
- ប្រើថ្នាំការពារ និងព្យាបាល ដែលមានការណែនាំខាងលើ ឱ្យបានខ្ជាប់ខ្ជួន និង ទៀងទាត់។

# ១២. ការកត់ត្រាចំណាយចំណូលផលិតកម្ម និង វិភាគសេដ្ឋកិច្ច

## *១២.១. ការកត់ត្រាចំណាយ និង ចំណូលផលិតកម្ម*

ការកត់ត្រាទុកនូវតួរលេខចំណាយ-ចំណូល មានសារៈសំខាន់ណាស់ ។ មាន ហេតុផលជាច្រើន ដែលគេចាំបាច់ត្រូវកត់ត្រាជាប្រចាំ ពីចំណាយ-ចំណូលផលិតកម្ម ។ ហេតុផលចំបងមួយចំនួន មានដូចជា៖

- ប្រសិនបើគ្មានការកត់ត្រាពីអ្វីដែលត្រូវបានចំណាយ ហើយអ្វីដែលបានចំណូលនោះទេ យើងនឹងមិន អាចដឹងបានទេ ថាតើ មុខជំនួញ (ដូចជា *ការចិញ្ចឹមត្រី ការចិញ្ចឹមកង្កែប*... ) របស់យើងខាត ឬ ចំណេញ? ចូរចងចាំថា *ការទទួលបានប្រាក់ចំណូលរាល់ថ្ងៃ មិនមានន័យថា យើងបានទទួលប្រាក់ ចំណេញនោះទេ* ។
- ប្រសិនបើយើងដឹងពីមុខចំណាយ និង មុខចំណូលច្បាស់លាស់ យើងអាចរិះរកវិធីដើម្បី គ្រប់គ្រង ជំនួញ ឱ្យបានកាន់តែល្អ កាន់តែបានចំណេញច្រើន។
- កំណត់ត្រាអាចត្រូវប្រើប្រាស់សម្រាប់ធ្វើផែនការចំណាយនៅពេលអនាគត ព្រោះយើងអាចដឹងពីតំលៃ និង ធនធានដែលត្រូវចំណាយ ។

គោលដៅចំបងនៃធ្វើជំនួញ ឬ ផលិតកម្មអ្វីមួយ គឺ ការរកបានចំណេញ និង កាន់តែចំណេញច្រើន ។ ប្រាក់ចំណេញ ជា **<u>ផលសង (ឬ ភាពខុសគ្នាជាវិជ្ជមាន)</u>** រវាង **ប្រាក់ចំណូល** (ដែលបានមកពីការលក់ផលិតផល ឬ សេវាកម្ម) និង **ប្រាក់ចំណាយទាំងអស់** ។ ចំណាយ អាចបែងចែកជា ២ ប្រភេទ គឺ ៖

(១) **<u>ចំណាយថេរ</u>** (មិនប្រែប្រួល[3]) គឺជា ចំណាយមូលធន ទៅលើរបស់ ឬ ឧបករណ៍ សម្ភារៈដែលប្រើ មួយសារ មិនខូច ឬ មិនអស់ ដូចជា ដី សំណង់ ឃ្លាំង ការសាងសង់អាងចិញ្ចឹម ការជីក ឬ រៀបចំស្រះ សំណាញ់បាំងព័ទ្ធជុំវិញស្រះ សម្ភារៈសាងសង់ទ្រើងត្រសក់ ម្រះ ធុងស្រោច ម៉ាស៊ីន បូមទឹក ប្រព័ន្ធស្រោចស្រពដំណក់ទឹក រោងបណ្តុះផ្សិត ទ្រុងមាន់ គ្រឿងចក្រ...... ដែលមានតំលៃ (ត្រូវកាត់ រំលស់) ជាប្រចាំ ទោះជាមានការផលិត ឬក៏ គ្មាន ក៏ដោយ ។ ដោយសារឧបករណ៍ និង សម្ភារៈ ក្នុងមុខចំណាយមិនប្រែប្រួលទាំងនេះ អាចប្រើបានច្រើនដង (គឺថា ប្រើម្តង មិនអស់) ហើយ អាចប្រើនៅក្នុងផលិតកម្ម សារក្រោយៗ បានទៀតនោះ គេត្រូវគិត រំលស់វា ជាច្រើនសារ / ដង ។ ការ កំណត់ចំនួនសាររំលស់ថ្លៃឧបករណ៍ និង សម្ភារៈ ក្នុងប្រភេទចំណាយមិនប្រែប្រួលនេះ អាចគិតបាន ច្រើនបែប ដូចជា តាម ចំនួនសារ (ដង) ផលិតកម្ម តាមអាយុកាល (រយៈពេល) អាចនៅប្រើបាន របស់វា ...... ។

[3] នៅពេលទិញ ឬ សាងសង់ហើយ (គឺថា បានចំណាយហើយ) ទោះបីប្រើ ឬ មិនប្រើក្តី សម្រាប់ការផលិតទំនិញ (ផលិតផល) អ្វីមួយ ក៏ដោយ ក៏គុណភាព (គឺថា វាក្លាយបន្តិចម្តងៗ ទៅជារបស់ចាស់ សឹករេចរិល...... ) ហើយ តំលៃរបស់វា នឹងត្រូវបាត់បង់ បន្តិចម្តងៗ ទៅតាមនោះដែរ។

ខាងក្រោមនេះគឺជា រូបមន្តសម្រាប់គណនារកប្រាក់រំលស់ មុខចំណាយថេរ / មិនប្រែប្រួល

ប្រាក់រំលស់មុខចំណាយថេរ/មិនប្រែប្រួល = ថ្លៃមុខចំណាយមិនប្រែប្រួល ចែកនឹង ចំនួនឆ្នាំ (ឬ ដង) នៃអាយុកាលប្រើប្រាស់ (ឆ្នាំ ឬ ដង)

(២) **ចំណាយប្រែប្រួល** គឺ ជាប្រភេទចំណាយជាក់ស្តែងសម្រាប់ការផលិតមុខផលិតផល ឬ សេវាកម្មអ្វីមួយ។ ការចំណាយប្រភេទនេះ រួមមាន វត្ថុធាតុដើម ដូចជា ពូជ (គ្រាប់ពូជ កូនត្រី កូនបង្កែប) ជី ចំណីថ្នាំ កំបោរស ការរៀបចំដី ថ្លៃបូមទឹកស្រោចស្រព ពលកម្ម...... ដែលត្រូវការ ចាំបាច់សម្រាប់ផលិតរបស់ ឬ ផលិតផលអ្វីមួយ (ដូចជា ត្រី កង្កែប បន្លែ ផ្សិតចំបើង ពោត សណ្តែក មាន់ ជ្រូក...) ។

ដើម្បីដឹងច្បាស់ឱ្យ ថាតើគោលដៅជោគជ័យជំនួញ សម្រេចបានត្រឹមណានោះ គេត្រូវការនូវព័ត៌មានជាចាំបាច់ ដែលមិនអាចរកបាន ក្រៅពីការកត់ត្រាជាប្រចាំ និង បានត្រឹមត្រូវរបស់យើង នោះឡើយ ។ ការកត់ត្រា អាចផ្តោតលើការប្រមូលព័ត៌មានចាំបាច់ សម្រាប់វិភាគចំណាយ និង ចំណេញ និង តម្រង់ទិសមុខរបរ ឬ ផលិតកម្ម តាមពេលវេលា ឱ្យចំ ឆ្លើយតបតាមតម្រូវការទីផ្សារ និង ទៅអនាគតខាងមុខ ។ ខាងក្រោមនេះ ជាទម្រង់កត់ត្រា[4] សាមញ្ញមួយ ដែលកសិករ (*អ្នកចិញ្ចឹមត្រី អ្នកចិញ្ចឹមកង្កែប*) អាចប្រើសម្រាប់កត់ត្រាចំណាយ ចំណូលរបស់ខ្លួន ។

*ក. តារាងចំណាយ*

ឈ្មោះផលិតកម្ម:.........................................

ថ្ងៃចាប់ផ្តើមផលិតកម្ម:.................................... ថ្ងៃបញ្ចប់ផលិតកម្ម:..........................

| ល.រ | មុខចំណូល | ឈ្មោះឯកតា | ចំនួនឯកតា | តំលៃក្នុង ១ ឯកតា | ទឹកប្រាក់សរុប |
|---|---|---|---|---|---|
| | | | | | |
| | | | | | |
| | | | | | |

*ខ. តារាងចំណូល*

ឈ្មោះផលិតកម្ម:.........................................

ថ្ងៃចាប់ផ្តើមផលិតកម្ម:.................................... ថ្ងៃបញ្ចប់ផលិតកម្ម:..........................

| ល.រ | មុខចំណូល | ឈ្មោះឯកតា | ចំនួនឯកតា | តំលៃក្នុង ១ ឯកតា | ទឹកប្រាក់សរុប |
|---|---|---|---|---|---|
| | | | | | |
| | | | | | |
| | | | | | |

[4] តាមគំរូ សៀវភៅកត់ត្រាគ្រប់គ្រងកសិដ្ឋានកសិករ របស់ គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប។

## ១២.២. ការប្រើប្រាស់ព័ត៌មានប្រមូលបាន សម្រាប់វិភាគចំណាយចំណូលផលិតកម្ម

ដើម្បីទទួលបានព័ត៌មាន ចាំបាច់ និងត្រឹមត្រូវ គេត្រូវកំណត់ឱ្យបានច្បាស់ពីមុខចំណាយ និង ចំណូលទាំងអស់ ហើយកត់ត្រាបានជាប្រចាំ និង បានត្រឹមត្រូវពីព័ត៌មាន ដែលបានកំណត់ទាំងនោះ ។ ព័ត៌មានប្រមូលបានទាំងនេះ នឹងត្រូវប្រើសម្រាប់ការវិភាគសេដ្ឋកិច្ច (គឺ ថ្លៃដើមផលិតផល និង ប្រាក់ចំណេញ) របស់ផលិតកម្មណាមួយ ។ ខាងក្រោមនេះ គឺជា ការកត់ត្រា និង វិភាគចំណាយ និងចំណូលពី *ការផលិតពូជកង្កែប* របស់កសិករធ្វើបង្ហាញបង្កាត់ភ្ញាស់កង្កែបម្នាក់ ឈ្មោះទឹម គឹមហ៊ន នៅភូមិ ត្រពាំងត្នាត ឃុំស្រម៉ ស្រុកជើងព្រៃ ខេត្តកំពង់ចាម។

### *ការវិភាគសេដ្ឋកិច្ចលើបង្កាត់ភ្ញាស់កង្កែបក្នុងអាង*

<u>កសិករឈ្មោះ</u> ទឹម គឹមហ៊ន — ភូមិ ត្រពាំងត្នាត ឃុំស្រម៉ ស្រុកជើងព្រៃ ខេត្តកំពង់ចាម

<u>បង្ហាញ</u> ការផលិតពូជកង្កែបក្នុងអាង — (កូនកង្កែប អាយុ ៤៥ថ្ងៃ)

<u>ថ្ងៃចាប់ផ្ដើមៈ</u> ថ្ងៃទី ១៦ មិថុនា ២០១៣ — <u>ថ្ងៃប្រមូលផលៈ</u> ថ្ងៃទី៣ សីហា ២០១៣

<u>ផ្ទៃអាង </u>១៨ ម៉ែត្រការ៉េ — ចំនួនមេពូជ ៣ គូ (ញីឈ្មោល)

| បរិយាយ | ឯកត្តា | ចំនួន | តម្លៃ/ឯកត្តា | សរុប | សរុបក្នុង១សារ |
|---|---|---|---|---|---|
| **១-ចំណូល** | | | | | |
| ក- ប្រាក់ចំណូលពីលក់កូនបង្កែប | ក្បាល | 8.000 | 500 | 4.000.000 | 4.000.000 |
| ចំណូលសរុប | | | | | 4.000.000 |
| **២ក-ចំណាយ ប្រែប្រួល** | | | | | |
| កម្លាំងពលកម្ម (ថែទាំឱ្យចំណី) ក្នុង1ផលិតកម្ម | នាក់-ថ្ងៃ | 11 | 15.000 | 165.000 | 165.000 |
| មេពូជ និង ចំណី | គូ (ញីឈ្មោល) | 3 | 40.000 | 120.000 | 120.000 |
| ចំណីគ្រាប់ (2 គីឡូក្រាម ក្នុង 1បាវ) | បាវ | 16 | 25.000 | 400.000 | 400.000 |
| បូមទឹកប្ដូរ 2ដង / ថ្ងៃ | ថ្ងៃ | 100 | 600 | 60.000 | 60.000 |
| ថ្នាំ ស៊ុបព្រីហ្វាក់ - ១៥ មីក្រូក្រាម + ម៉ូទីល្យ៉ូម | លើក/ដង | 1 | 5.000 | 5.000 | 5.000 |
| សរុបចំណាយប្រែប្រួល (TVC) | | | | | 755.000 |
| *<u>៣ក-ប្រាក់ចំណេញ ធៀប ចំណាយប្រែប្រួល TVC</u>* | | - | - | - | |
| **២ខ-ចំណាយមិនប្រែប្រួល/ថេរ** | | | | | |
| ថ្លៃរំលស់អាងចិញ្ចឹម (សម្ភារៈ + ឈ្នួលជាង) (36.000 រៀល ប្រើបាន2 ឆ្នាំ 2ដង/ ឆ្នាំ) | វដ្ត | 1 | 90.000 | 90.000 | 90.000 |
| ម៉ាស៊ីនបូមទឹក (200.000 ប្រើបាន 5ឆ្នាំ) | វដ្ត | 1 | 40.000 | 40.000 | 20.000 |
| សរុបចំណាយមិនប្រែប្រួល / ថេរ (TFC) | | | | | 130.000 |
| | | | | | |
| **២គ-ចំណាយសរុប** ( TC = TVC+TFC ) | | | | | **885.000** |
| *<u>៣ខ-ប្រាក់ចំណេញ ធៀបចំណាយ សរុប TC</u>* | | | | | **3.115.000** |

# ឧបសម្ព័ន ១: សន្និកគំរូកំណត់ត្រាចំណាយចំណូលផលិតកម្ម

*(ស្រង់ពីកំណត់ត្រាកសិកររបស់គម្រោង TSTD)*

ព័ត៌មានសម្រាប់ទំនាក់ទំនងប្រតិបត្តិករទីផ្សារ

| ល.រ | ឈ្មោះ | ភេទ | ទូរស័ព្ទទំនាក់ទំនង |
|---|---|---|---|
| ក- អ្នកផលិត | | | |
| | | | |
| | | | |
| | | | |
| | | | |
| | | | |
| | | | |
| | | | |
| ខ- អ្នកផ្គត់ផ្គង់សម្ភារៈ | | | |
| | | | |
| | | | |
| | | | |
| គ- អ្នកប្រមូលទិញ - លក់ | | | |
| | | | |
| | | | |
| | | | |
| | | | |
| ឃ- ផ្សេងៗ | | | |
| | | | |
| | | | |
| | | | |
| | | | |

**១. បច្ចេកវិទ្យាបានរៀន**

១-ឈ្មោះបច្ចេកវិទ្យា:........................................................................................................

គ្រូឧទ្ទេសនាម: ........................................................................................................

អាស័យដ្ឋានទាក់ទង: ........................................................................................................

កម្មវិធីសិក្សា:

| ថ្ងៃ-ខែ-ឆ្នាំ | សកម្មភាពសិក្សា | ផ្សេងៗ |
|---|---|---|
| | | |
| | | |
| | | |
| | | |
| | | |
| | | |
| | | |

## ២. ប្រភេទផលិតកម្ម:..........................................................

### ២-ក- ចំណាយផលិតកម្ម

ថ្ងៃចាប់ផ្តើម: ..........................................................

ថ្ងៃបញ្ចប់ :..........................................................

| ថ្ងៃ-ខែ | ឈ្មោះមុខទំនិញ | ឯកតា | ចំនួន | តម្លៃ/ឯកត្តា | ទឹកប្រាក់សរុប |
|---|---|---|---|---|---|
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | សរុបពលកម្ម | | | | |
| | | | | | |

### ២-ខ-ចំណូលផលិតកម្ម

| ថ្ងៃ-ខែប្រមូលផល | ឯកតា | ចំនួន | តម្លៃ-ឯកត្តា | ទឹកប្រាក់សរុប |
|---|---|---|---|---|
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |
| | | | | |

## ឧបសម្ព័ន ២: បញ្ជីរាយនាមអ្នកពាក់ព័ន្ធក្នុងការផលិតពូជកង្កែប

| ល.រ | ឈ្មោះ | ភេទ | អាសយដ្ឋាន | លេខទូរស័ព្ទ |
|---|---|---|---|---|
| ក. អ្នកផ្គត់ផ្គង់សម្ភារ: ខេត្តសៀមរាប | | | | |
| ១ | ហេងបូរេន | ស្រី | ភូមិវាល ឃុំសំបួរ ក្រុង សៀមរាប ខេត្ត សៀមរាប | ០១២ ៨០ ២៣ ៩៥ |
| ២ | ម៉ន ស | ស្រី | ភូមិជ្រៃ ឃុំសំបួរ ក្រុង សៀមរាប ខេត្ត សៀមរាប | ០១៧ ៦២ ០៨ ១៧ |
| ៣ | រី យន | ប្រុស | ភូមិតាចក ឃុំស្រង៉ែ សៀមរាប ខេត្ត សៀមរាប | ០១២ ២៥ ៨០ ៥៧ |
| ខ. អ្នកផ្គត់ផ្គង់ សម្ភារ: ខេត្ត កំពង់ចាម | | | | |
| ១ | ទឹម គិមហ៊ន | ស្រី | ភូមិត្រពាំងត្នោត ឃុំស្រម៉ ជើងព្រៃ កំពង់ចាម | ០៩៥ ៨៥១ ៥៩១ |
| ២ | ញិល សារ៉ុន | ស្រី | ភូមិកំប៉ាល ឃុំសណ្តែក បាធាយ កំពង់ចាម | ០១២ ៣៨៨ ៧៩៥ |
| ៣ | នាង ម៉ៅ | ប្រុស | ភូមិសូជី សំរោង ឃុំព្រៃឈរ កំពង់ចាម | ០១៧ ៣៩៧ ១៧១ |
| គ. អ្នកផ្គត់ផ្គង់ សម្ភារ: ខេត្ត បន្ទាយមានជ័យ | | | | |
| ១ | ផ្លែង យ៉ុន | ប្រុស | ភូមិកន្ទួត ភ្លៀត សិរីសោភ័ណ បន្ទាយមានជ័យ | ០៧៧ ៨២៩ ៧៨៤ |
| ២ | ទឹត សណ្តំ | ស្រី | ភូមិព្រះអង្គ កោះពងសត្វ សិរីសោភ័ណ បន្ទាយមានជ័យ | ០៨៨៧៧៥៥០៦២ |

## ឯកសារយោង

1. Lecture note of Third Country Training Programme on Freshwater Aquaculture, 2003.
រៀបចំដោយ វិទ្យាស្ថានជាតិទឹកសាប នៃព្រះរាជាណាចក្រថៃ

2. Diagnostic Procedures for Finfish Diseases រៀបចំដោយ Aquatic Animal Health Research Institute 1999.

## កែសម្រួលដោយលោក

**១. អ៊ុច ឡុង:** ជំនាញឯកទេសវារីវប្បកម្មថ្នាក់ជាតិ (មកពី FiA) នៃគម្រោង TSTD
**២. លីវ លាងហ៊ី:** ប្រធានក្រុមទីប្រឹក្សានៃគម្រោង TSTD